ព្រះរាជាណាចក្រកម្ពុជា

ជាតិ សាសនា ព្រះមហាក្សត្រ




ក្រសួងអប់រំ យុវជន និងកីឡា

ជំនួយឧបត្ថម្ភក្នុងការបង្ហាញដោយ

TRISILCO SOLUTIONS

ក្រុមហ៊ុន ទ្រីសីលខូ សឹលូសិន (ខាមបូឌា)

TRISILCO SOLUTIONS (CAMBODIA) CO., LTD

# ការតម្លើង និងប្រើប្រាស់ Desktop Virtualization

# ដោយប្រើប្រាស់ឧបករណ៍ NComputing ជាមួយ

# Ubuntu Desktop 12.04 LTS

រៀបរៀងដោយ៖ លោក ហេង ណារិទ្ធ

ថ្ងៃទី ០៦ ដល់ថ្ងៃទី ១០ ខែ ឧសភា ឆ្នាំ ២០១៣

# មាតិកា

## មេរៀនទី១: របៀបតម្លើងប្រព័ន្ធប្រតិបត្តិការ Ubuntu Desktop 12.04 LTS ទំព័រ

**មេរៀនទី៣: របៀបតម្លើង និងប្រើកម្មវិធីនៅលើ Ubuntu Desktop 12.04 LTS**

មេរៀនទី១

# របៀបតម្លើងប្រព័ន្ធប្រតិបត្តិការ Ubuntu Desktop 12.04 TLS

## ១. អ្វីជាប្រព័ន្ធប្រតិបត្តិការកុំព្យូទ័រ Computer Operating System ៖

ប្រព័ន្ធប្រតិបត្តិការ (Operating System) គឺជាផ្នែកទន់ (Software)មួយដ៏សំខាន់ក្នុងប្រព័ន្ធកុំព្យូទ័រប្រសិនបើអ្នកគ្មានប្រព័ន្ធប្រតិបត្តិការនេះទេ កុំព្យូទ័ររបស់អ្នកនឹងមិនអាចដំណើរការបាននោះទេហើយលោកអ្នកក៏មិនអាចដំឡើងកម្មវិធីផ្សេងៗលើកុំព្យូទ័ររបស់អ្នកបានដែរ ។ កុំព្យូទ័រចាំបាច់ត្រូវ តែមានប្រព័ន្ធប្រតិបត្តិការនេះ វាមានតួនាទីបញ្ជាទៅគ្រប់ផ្នែករឹង (Hardware) ទាំងអស់របស់កុំព្យូទ័រ ។ ប្រព័ន្ធប្រតិបត្តិការមានច្រើនប្រភេទដូចជា ៖ Windows XP, Windows 7, Windows Server 2003-2008, Ubuntu ជាដើម ។ល។ ខាងក្រោមនេះ លោកអ្នកនឹងរៀនពីរបៀបដំឡើង ប្រព័ន្ធប្រតិបត្តិការ Ubuntu Desktop 12.04 LTS ។

## ២. របៀបតម្លើង ប្រព័ន្ធប្រតិបត្តិការ Ubuntu Desktop 12.04 LTS ៖

ដើម្បីដំឡើង ប្រព័ន្ធប្រតិបត្តិការ Ubuntu Desktop 12.04 LTS នេះបានកុំព្យូទ័ររបស់អ្នកតម្រូវឲ្យមានសមត្ថភាព របស់ CPU ចាប់ពី 2 Gigahertz ឡើងទៅ RAM ទំហំចាប់ពី 512 Megabytes និងHDD ទំនេរចាប់ពី 5 Gigabytes ឡើងទៅ ។ ការដំឡើងមានជាបន្តបន្ទាប់ដូចតទៅ ៖

### ២.១. ការតម្លើងតាម Default Setting របស់ Ubuntu Desktop 12.04 LTS

**ជំហានទី១** ៖ ដាក់ CD Ubuntu Desktop 12.04 LTS ចូលទៅក្នុង CD-ROM Drive រួច Restart កុំព្យូទ័ររបស់អ្នកបន្ទាប់មកចុច Key F12 ហើយជ្រើស យកពាក្យ Boot from CD បន្តិចក្រោយមកអ្នកនឹងឃើញឃ្លាសរសេរថា Press Any Key to Continue អ្នកអាចចុច Key ណាមួយក៏បានដើម្បីបន្តដំណើរការ នេះហើយអ្នក នឹងឃើញផ្ទាំងដូចខាងក្រោមបង្ហាញនេះ ។




ជ្រើសរើសយកភាសា English ហើយចុចលើ Install Ubuntu

**ជំហានទី២** ៖ នៅពេលដែលវាបង្ហាញផ្ទាំងដូចខាងក្រោមនេះ ចុចលើប៊ូតុង Continue




**ជំហានទី៣** ៖ ចុចលើប៊ូតុង Erase disk and install Ubuntu ហើយចុចលើ Continue ដើម្បីបន្ត



**<u>ជំហានទី៤</u>** ៖ ជ្រើសរើស HDD បន្ទាប់មកចុចលើ Install Now




**<u>ជំហានទី៥</u>** ៖ បន្ទាប់ពីចុចលើ Install Now វាចាប់ផ្ដើមដំណើរការ




**<u>ជំហានទី៦</u>** ៖ បន្ទាប់មកវាយពាក្យ Phnom Penh ដើម្បីជ្រើសរើសទីតាំង ហើយចុចលើ Continue



**ជំហានទី៧** ៖ បន្ទាប់មកជ្រើសរើស Keyboard layout ជា Khmer ឬ English ហើយចុច Continue




**ជំហានទី៨**៖ បន្ទាប់ដាក់ Username និង Password របស់អ្នកប្រើប្រាស់ហើយចុចលើ Continue




**ជំហានទី៩**៖ បន្ទាប់មកវាចាប់ផ្តើមដំណើរការក្នុងការតម្លើង



**ជំហានទី១០៖** បន្ទាប់ពីបានតម្លើងចប់ វានឹងទាមទារ Restart ម៉ាស៊ីន ចុចលើ Restart Now




**ជំហានទី១១៖** ក្នុងពេលយើង Restart វានិងទាមទារឲ្យយើងដក CD Installation




**ជំហានទី១២៖** បន្ទាប់ពី Restart ហើយ វានិងឲ្យយើង Log In ចូលក្នុង កុំព្យូទ័រ



**ជំហានទី១៣**៖ បន្ទាប់ពី Log In វានិងបង្ហាញផ្ទាំង Desktop ដូចរូបខាងក្រោមនេះ




## ២.២. ការតម្លើងតាម Custome Setting របស់ Ubuntu Desktop 12.04 LTS

**ជំហានទី១** ៖ ដាក់ CD Ubuntu Desktop 12.04 LTS ចូលទៅក្នុង CD-ROM Drive រួច Restart កុំព្យូទ័ររបស់អ្នកបន្ទាប់មកចុច Key F12 ហើយជ្រើស យកពាក្យ Boot from CD បន្តិចក្រោយមកអ្នកនឹងឃើញឃ្លាសរសេរថា Press Any Key to Continue អ្នកអាចចុច Key ណាមួយក៏បានដើម្បីបន្តដំណើរការ នេះ ហើយអ្នក នឹងឃើញផ្ទាំងដូចខាងក្រោមបង្ហាញនេះ ។




ជ្រើសរើសយកភាសា English ហើយចុចលើ Install Ubuntu

**ជំហានទី២** ៖ នៅពេលដែលវាបង្ហាញផ្ទាំងដូចខាងក្រោមនេះ ចុចលើប៊ូតុង Continue




**ជំហានទី៣** ៖ ចុចលើប៊ូតុង Something else ហើយចុចលើ Continue ដើម្បីបន្ត




**ជំហានទី៤** ៖ ជ្រើសរើស HDD ដែលយើងចង់ចែក Partition ហើយចុចលើ New Partition Table



**ជំហានទី៥** ៖ ចុចលើ Continue ដើម្បីបន្ត




**ជំហានទី៦** ៖ ចុចលើ HDD Free Space ហើយចុចលើ Add




**ជំហានទី៧** ៖ ដាក់ចំនួនគុណនិងពីនៃRAM (RAM size*2) សម្រាប់ Partition SWAP ហើយ OK



**ជំហានទី៨** ៖ បន្ទាប់ពីបង្កើត Primary Partition ជា SWAP យើងត្រូវបង្កើត Partition មួយទៀត




**ជំហានទី៩** ៖ កំណត់ចំនួនទំហំរបស់ Primary Partition លើ “/” root ហើយចុចលើ OK




**ជំហានទី១០** ៖ បន្ទាប់ពីបង្កើត Primary Partition របស់ SWAP និង “/” root រួចចុចលើ Install Now



**ជំហានទី១១** ៖ បន្ទាប់មកវាយពាក្យ Phnom Penh ដើម្បីជ្រើសរើសទីតាំង ហើយចុចលើ Continue




**ជំហានទី១២**៖ បន្ទាប់មកជ្រើសរើស Keyboard layout ជា Khmer ឬ English ហើយចុច Continue




**ជំហានទី១៣**៖ បន្ទាប់ដាក់ Username និង Password របស់អ្នកប្រើប្រាស់ហើយចុចលើ Continue



**<u>ជំហានទី១៤</u>**៖ បន្ទាប់មកវាចាប់ផ្តើមដំណើរការក្នុងការតម្លើង




**<u>ជំហានទី១៥</u>**៖ បន្ទាប់ពីបានតម្លើងចប់ វានឹងទាមទារ Restart ម៉ាស៊ីន ចុចលើ Restart Now




**<u>ជំហានទី១៦</u>**៖ ក្នុងពេលយើង Restart វានិងទាមទារឲ្យយើងដក CD Installation



**<u>ជំហានទី១៧</u>**៖ បន្ទាប់ពី Restart ហើយ វានិងឲ្យយើង Log In ចូលក្នុង កុំព្យូទ័រ




**<u>ជំហានទី១៨</u>**៖ បន្ទាប់ពី Log In វានិងបង្ហាញផ្ទាំង Desktop ដូចរូបខាងក្រោមនេះ



មេរៀនទី២

# របៀបធ្វើឲ្យកុំព្យូទ័រកូនអាចភ្ជាប់មកកុំព្យូទ័រមេបាន

## NComputing Configuration

ជាធម្មតាបន្ទប់កុំព្យូទ័រដែលប្រើ NComputing ទោះបីជាយើដំឡើងប្រព័ន្ធប្រតិបត្តិការរួចរាល់ក៏ដោយ ក៏យើងមិនទាន់អាចភ្ជាប់ NComputing ទាំងនោះមកកុំព្យូទ័រមេបានភ្លាមដែរ យើត្រូវរៀបចំនិងតម្លើងកម្មវិធីមួយចំនួនទៀតទើបអាចឲ្យប្រព័ន្ធទាំងមូលអាចដំណើរការជាមួយគ្នាបាន ។ ការរៀបចំដ៏ចាំបាច់ទាំងនោះរួមមានដូចខាងក្រោម ៖

### ១. របៀបបង្កើតចំនួនអ្នកប្រើ Create User Account ៖

ការបង្កើតចំនួនអ្នកប្រើនេះវាផ្អែក ទៅលើចំនួន NComputing ដែលប្រើនៅក្នុងបន្ទប់កុំព្យូទ័ររបស់លោកអ្នក ។ ឧទាហរណ៍ ៖ ប្រសិនបើបន្ទប់កុំព្យូទ័ររបស់លោកអ្នកមាន NComputing ចំនួន 25គ្រឿង អ្នកត្រូវបង្កើតចំនួនអ្នក ប្រើចំនួន25 ដែរ ។ ដើម្បីបង្កើតចំនួនអ្នកប្រើបានអ្នកត្រូវធ្វើដូចខាងក្រោម៖

**ក**. ចុច Start Key ឬ ចុចលើ Dash Home របស់ Ubunut Desktop 12.04 LTS ហើយវាយពាក្យ User បន្ទាប់មកវានិងចេញ iCon មួយដែលមានរូបរាងនិង User Accounts បន្ទាប់មកទៀតចុចលើរូប User Accounts នោះ



ខ. ចុចលើរូបសោរដើម្បី Unlock ហើយវានិងទាមទារ Password របស់ User Administrator បន្ទាប់ពីដាក់ Password របស់ Administrator រួចមក យើងចុចលើ Authenticate




គ. បន្ទាប់មកយើងចុចលើសញ្ញាបូកដើម្បីបង្កើត User




ឃ. បន្ទាប់មកទៀតយើងដាក់ឈ្មោះ User ដែលយើងចង់បង្កើត រួចចុចលើ Create



ខ. បន្ទាប់ពីបង្កើត User ហើយ យើងត្រូវចុចលើ Password Disable ដើម្បីដាក់ Password ឲ្យ User



ឃ. បន្ទាប់មកដាក់ Password ឲ្យ User តាមអ្វីដែលគេចង់ដាក់



## ២. របៀបដាក់ IP Address លើ Ubuntu Desktop 12.04 LTS ៖

ការដាក់ IP Address នេះ គឺជាទំនាក់ទំនងយ៉ាងសំខាន់សម្រាប់ កុំព្យូទ័រមេ និងឧបករណ៍ NComputing យើងត្រូវកំណត់ IP Address នេះក្នុងលំដាប់ “C” ។ បើយើងដាក់ IP Address ត្រូវលំដាប់គ្នានោះ វានិងបង្កើនការងាយស្រួលក្នុងការភ្ជាប់ទំនាក់ទំនងគ្នារវាងកុំព្យូទ័រមេ និងឧបករណ៍ NComputing ។

ឧទាហរណ៍៖ បើក្នុងការិយាល័យរបស់យើងមាន DHCP server នោះវានិងចាប់យក IP Address ដោយខ្លួនឯង ប៉ុន្តែបើយើងគ្មាន DHCP server ទេនោះ យើងត្រូវដាក់ IP Address ដោយខ្លួនឯង។ IP Address អាចមានរូបរាងដូចខាងក្រោម៖

IP: 192.168.X.X
Subnetmask: 255.255.255.0
Gateways: 192.168.X.X

ក. ចុច Start Key ឬ ចុចលើ Dash Home របស់ Ubunut Desktop 12.04 LTS ហើយវាយពាក្យ Network បន្ទាប់មកវានិងចេញ iCon មួយដែលមានរូបរាងនិង Network បន្ទាប់មកទៀតចុចលើរូប Network នោះ




ខ. ចុចលើពាក្យ Wired ហើយចុចលើពាក្យ Options បន្ទាប់មកវានិងចេញផ្ទាំង Network ហើយចុចលើ IPv4 Settings បន្ទាប់មកដាក់ IP Address ស្ថិតនៅក្នុងលំដាប់ “C” ហើយចុចលើ Save



គ. បន្ទាប់ពីដាក់ IP Address និង Save រួចមក វានិងបង្ហាញ IP Address ដែលអ្នកបានបង្កើត



## ៣. រៀបដាក់ Keyboard Layout លើ Ubuntu Desktop 12.04 LTS ៖

ការដាក់ Keyboard Layout អាចធ្វើឲ្យយើងសរសេរភាសាអ្វីដែលយើងបានដាក់បាន ។ ឧទាហរណ៍៖ Engilsh ឬ Khmer(Cambodia) ។

**ក**. ចុចលើ System Settings ដែលនៅខាងស្តាំដៃ បន្ទាប់មកវានិងចេញផ្ទាំង System Settings ហើយចុចលើ Keyboard Layout



**ខ**. បន្ទាប់មកយើងចុចលើសញ្ញាបូកដើម្បី Add Keyboard Layout



**គ**. វាយពាក្យដែលអ្នកចង់ Add មានដូចជា Khmer ឬ English ហើយចុចលើ Add



**ឃ**. ដើម្បី Change Keyboard Layout ត្រូវចុចលើ Options



**ខ**. ចុចលើ Key(s) to change layout ហើយចុចលើ Alt + Shift ហើយចុចលើ Close



## ៤. **របៀបតម្លើង** vSpace Server **លើ** Ubuntu Desktop 12.04 LTS ៖

vSpace Server គឺជាកម្មវិធី (Software) មួយដែលប្រើប្រាស់សម្រាប់ទទួលនូវទំនាក់ទំនងរវាង កុំព្យូទ័រមេ (Machine Server) ទៅកុំព្យូទ័រកូន (Machine Clients) ដែលអាចឱ្យវាទាក់ទងគ្នាបានដោយគ្រាន់តែប្រើប្រាស់ កុំព្យូទ័រមេ (Machine Server) មួយ ឬពីរគ្រឿង និងប្រើប្រាស់ កុំព្យូទ័រកូន (Machine Clients) ដែលប្រើប្រាស់ តែ Monitor LCD Keyboard Mouse និង ឧបករណ៍ NComputing ម៉ូដែល L130 L300 ឬM300សម្រាប់ កន្លែងអង្គុយមួយ (Seat)។ ដើម្បីតម្លើងកម្មវិធី vSpace Server យើងត្រូវបញ្ចូល CD ដែលបានភ្ជាប់មកជាមួយ នឹងប្រអប់របស់ឧបករណ៍ NComputing ដែលយើងទិញ ឬDownload Software vSpace ពី Website: http://www.ncomputing.com/support/software-downloads រួចតម្លើងវា។

ដើម្បីស្វែងយល់ពីការតម្លើង vSpace Server Software យើងអាចធ្វើតាមរបៀបដូចរូបខាងក្រោមនេះ៖

ក.បើក Command Prompt រួចវាយ Command ៖ ***sudo sh vspace_filename*** បន្ទាប់មកដាក់ Password របស់ User root/Administrator



ខ. បន្ទាប់មកវានឹងចេញផ្ទាំងមួយទៀតដើម្បីឲ្យយើងបន្តការ Setup vSpace Server យើងត្រូវ Tick លើ I accept the terms of the EULA បន្ទាប់មកចុចលើ Forward ដើម្បីបន្ត




គ. បន្ទាប់មក យើងត្រូវបំពេញព័ត៌មាន ដែលវាត្រូវការ បន្ទាប់មកចុចលើ Forward ដើម្បីបន្ត



**ឃ**. បន្ទាប់ពីយើងបំពេញព័ត៌មាន ដែលវាត្រូវការហើយ វានឹងបង្ហាញព័ត៌មានដែលយើងបានបំពេញ បន្ទាប់មកចុចលើ Apply ដើម្បីបន្ត




**ង**. បន្ទាប់ពីបានចុចលើ Apply វានឹងទាមទារឲ្យយើង Restart ម៉ាស៊ីន ចុចលើ Yes ដើម្បី Restart




**ច**. បន្ទាប់ពី Restart ម៉ាស៊ីន យើងអាចស្វែងរក NC Console ពី Dash Home បាន ដោយគ្រាន់តែវាយពាក្យ NComputing វានឹងបង្ហាញ NC Console ឲ្យយើងឃើញភ្លាម



# ៥. របៀបកំណត់ IP Address និងឈ្មោះលើ NComputing ៖

ជាការកំណត់នៅលើកុំព្យូទ័រកូន ដូចនេះអ្នកត្រូវ ទៅបើកកុំព្យូទ័រកូន ។ ខាងក្រោមនេះជា ឧទាហរណ៍ សម្រាប់ការកំណត់ឲ្យកុំព្យូទ័រកូន ដែលមានឈ្មោះ ព្រមទាំង IP Address សម្រាប់កុំព្យូទ័រកូន ។

**ក**. របៀបកំណត់ IP Address លើកុំព្យូទ័រកូន ៖ អ្នកត្រូវបើកុំព្យូទ័រកូនរួចរងចាំ រហូតដល់ឃើញផ្ទាំងដូចខាងក្រោម រួចចុចលើ Options




**ខ**. ចុចប៊ូតុង Setup ដើម្បីដាក់ IP Address នឹងឈ្មោះអ្នកប្រើប្រាស់




**គ**. លើផ្ទាំង Network ជ្រើសរើសយកពាក្យ Use Statistic IP Address ហើយដាក់ IP Address



**ចំណាំ ៖** ការកំណត់ IP Address ឲ្យកុំព្យូទ័រមេ និងកុំព្យូទ័រកូន មិនអាចជាន់គ្នាបាននោះទេ ។ មើលការកំណត់ជាឧទាហរណ៍ដូចខាងក្រោម ៖

- កុំព្យូទ័រមេ = 192.168.001.002
- កុំព្យូទ័រកូន PC1 = 192.168.001.003
- កុំព្យូទ័រកូន PC2 = 192.168.001.004
- កុំព្យូទ័រកូន PC3 = 192.168.001.005

ចំពោះ Geteway ត្រូវកំណត់ដូចគ្នាទាំងអស់សម្រាប់កុំព្យូទ័រកូនគឺ 192.168.001.001

**ឃ**. នៅលើផ្ទាំង Options ជ្រើសរើសយក Auto detection ហើយចុចលើ Edit




**ង**. ដាក់ឈ្មោះ Username នៅលើម៉ាស៊ីនកូន និងជ្រើសរើសដូចចំនុចដែលបានដៅ




**ចំណាំ ៖** អ្នកត្រូវអនុវត្តដដែលៗត្រង់ចំណុច **គ ឃ** និង **ង** ខាងលើចំពោះគ្រប់កុំព្យូទ័រកូនទាំងអស់ ដូចជា PC2, PC3, PC4... បន្ទាប់យើងត្រូវចុច OK ដើម្បីរក្សាអ្វីដែលយើងបានកំណត់ ។

**ច**. នៅលើផ្ទាំង Password ជ្រើសរើសយក Protect device Setup Options with Password បន្ទាប់មក ក្នុងប្រអប់ Enter Password និងType it again ត្រូវដាក់ Password ឲ្យដូចគ្នា តាមដែលអ្នកត្រូវការ ហើយចុចលើ OK ដើម្បីយល់ព្រមលើការកំណត់នេះ ។ បន្ទាប់មកទៀតយើងចុច Save ដើម្បីរក្សាទុកនូវអ្វីដែលយើងបានកំណត់ពីមុនមក




**ឆ**. នៅពេលដែលចង់ប្តូរការកំណត់ណាមួយទៀតនោះ ត្រូវចុចលើ Options បន្ទាប់មកចុចលើ Setup ពេលនោះវានឹងទាមទារ Password ដែលអ្នកបានកំណត់កាលពីពេលមុន បន្ទាប់ពីដាក់ Password រួចរាល់ អ្នកចុចលើ OK វានឹងអនុញ្ញាតិឲ្យអ្នកចូលទៅប្តូរតាមចិត្តរបស់អ្នក




**ចំណាំ ៖** នៅពេលអ្នកបានភ្លេច Password ដែលបានដាក់លើ NComputing នោះ អ្នកអាចធ្វើការ Reset វាម្តងទៀតបាន ប៉ុន្តែរាល់ការកំណតផ្សេងៗដែលអ្នកបានកំណត់នៅលើ NComputing នោះត្រូវបានលុបចោលទាំងអស់ ។ ដូច្នេះអ្នកត្រូវធ្វើការកំណត់ឡើងវិញតាំងពីចំនុច **ក** រហូតដល់ **ឆ** ។ Password នេះធ្វើបានតែ L130 និង L230 តែប៉ុណ្ណោះ ។ អ្នកត្រូវវាយដាក់ក្នុងប្រអប់ Enter Password ជាមួយនឹង 1776$admin បន្ទាប់ចុច OK នោះវានឹងទាមទារ Restart NComputing ។ បន្ទាប់ពី Restart អ្នកអាចធ្វើការកំណត់បានតាមតម្រូវការ ។

**៦**. បន្ទាប់ពីបានរក្សានូវការកំណត់របស់អ្នកហើយនោះ វានឹងចេញផ្ទាំងដូចខាងក្រោម យើងត្រូវចុចលើឈ្មោះម៉ាស៊ីនមេ (LAB02) បន្ទាប់មកទៀតចុចលើ Connect ដើម្បីភ្ជាប់ទៅកាន់កុំព្យូទ័រនោះ




**៧**. បន្ទាប់ពីបានចុចលើពាក្យ Connect ហើយវានឹងចាប់ផ្តើមធ្វើការភ្ជាប់ទៅម៉ាសស៊ីនមេដូចរូបនេះ




**៨**. បន្ទាប់មកវានឹងចេញ Username ហើយអ្នកគ្រាន់តែចុចលើ Username នោះ បន្ទាប់ដាក់ Password របស់ User នោះជាការស្រាច់



# មេរៀនទី៣ របៀបតម្លើង និងប្រើ កម្មវិធីនៅលើ Ubuntu Desktop 12.04 LTS

## ១. របៀបតម្លើងកម្មវិធី Open Office

ដើម្បីតម្លើងកម្មវិធី Open Office នៅលើ Ubuntu Desktop 12.04 LTS យើងត្រូវ Uninstall Libre Office នៅលើ Ubuntu Desktop 12.04 LTS ដែលវាមកជាមួយនឹង Ubuntu Desktop 12.04 LTS ជាមុនសិន។ បន្ទាប់មកទើបយើងអាចចាប់ផ្តើមធ្វើការតម្លើងកម្មវិធី Open Office បាន។

ក. បើក Terminal ដើម្បីធ្វើការ Run Command




ខ. វាយ Command ដើម្បី Uninstall Libre Office: **$** ***sudo apt-get remove –purge libreoffice-core*** បន្ទាប់មកវានឹងទាបឲ្យយើងដាក់ Password របស់ Root/Administrator ហើយចុច Y ដើម្បីយល់ព្រម



គ. បន្ទាប់ពីបាន Uninstall Libre Office រួចរាល់ហើយនោះ យើងចាប់ផ្តើមធ្វើការតម្លើង Open Office ដោយយើងត្រូវមាន Software របស់ Open Office ជាមុនសិន ហើយយើងដាក់នៅលើទីតាំងណាមួយ ។ ឧទាហរណ៏៖ យើងដាក់ Software នៅលើ Desktop ដូច្នេះយើងត្រូវប្រើ Command ដើម្បីចូលទៅកាន់ទីតាំងរបស់ Desktop ហើយពន្លា Software ដូចខាងក្រោម ៖

ទី១ ៖ ***$ cd Desktop/***

ទី២ ៖ ***tar –xvzf file_name***




ឃ. បន្ទាប់ពីបានធ្វើការពន្លារួចមកយើងចាប់ផ្តើមចូលមើលនឹងតម្លើង ដោយប្រើ Command

ទី១ ៖ ***cd folder_name/***

ទី២ ៖ ***ls***

ទី៣ ៖ ***cd folder_DEBS/***

ទី៤ ៖ ***ls***

ទី៥ ៖ ***sudo dpkg –I *.deb***

ទី៦ ៖ ***cd desktop-intergration/***

ទី៧ ៖ ***sudo dpkg –I *.deb***



ង. បន្ទាប់ពីការតម្លើង Open Office រួចរាល់អស់ យើងចាប់ផ្តើមទៅបើវាយកមកប្រើ




ច. រូបភាពខាងក្រោមនេះជាការចូលទៅកាន់ការប្រើប្រាស់របស់ Open Office




## ២. របៀបតម្លើងកម្មវិធី VLC Media Player

ក. យើងចូលទៅចុចលើ Ubuntu Software Center ដើម្បីតម្លើងកម្មវិធីផ្សេងៗ ដែលយើងដាក់ចូលទៅកាន់ម៉ាស៊ីនកុំព្យូទ័រនេះ ។ បញ្ជាក់៖ រាល់ពេលដែលយើងតម្លើងគឺវាត្រូវការ Internet Connection



ខ. បន្ទាប់មករូបភាពផ្ទាំងរបស់ Ubuntu Desktop Center ក៏បានផុសឡើង




គ. យើងគ្រាន់តែវាយក្នុងប្រអប់ Search ជាមួយនឹង Software ដែលយើងត្រូវការ ដូចជា VLC បន្ទាប់មកចុចលើពាក្យ Install




ឃ. បន្ទាប់ពីបានចុចលើពាក្យ Install វានឹងទាមទារឲ្យយើងវាយ Password របស់ Root/Administrator បន្ទាប់មកទៀតយើងចុចលើពាក្យ Authenticate នៅពេលនោះវានឹងធ្វើការតម្លើង ហើយ យើងគ្រាន់តែចាំវាមួយភ្លែតតែប៉ុណ្ណោះ ។



# ៣. បញ្ហាមួយចំនួនដែលកើតមានឡើង និងដំណោះស្រាយ

**ក. vSpace ពណ៌លឿង**

-Remove ចាស់ចោលហើយតំឡើងថ្មី

-យើងអាច Restore file មកវិញដែលយើងបាន Backup ទុក

**ខ. ម៉ាស៊ីនកូនមានបញ្ហា 1 or 2**

-មើលទៅលើ Cable Net work

-អាចមានបញ្ហា NComputing → ចូល Editម្តងទៀត

-លុប User ចាស់ចោលបង្កើតថ្មី

**គ. មិនឃើញឈ្មោះម៉ាស៊ីនមេបង្ហាញនៅលើម៉ាស៊ីនកូនទាំងអស់**

-អាចបណ្តាលមកពី Disable Network

-មើលទៅលើ Cable Net work ម៉ាស៊ីនមេ

-អាចបណ្តាលពីម៉ាស៊ីនមេមានបញ្ហា Network card on board

-អាចបណ្តាលពី Switch /hub